(Sin in Islam, Part III)

الَّذِينَ يَجْتَنِبُونَ كَبَائِرَ الْإِثْمِ وَالْفَوَاحِشَ إِلَّا اللَّمَمَ ۚ إِنَّ رَبَّكَ وَاسِعُ الْمَغْفِرَةِ ۚ هُوَ أَعْلَمُ بِكُمْ إِذْ أَنْشَأَكُمْ مِنَ الْأَرْضِ وَإِذْ أَنْتُمْ أَجِنَّةٌ فِي بُطُونِ أُمَّهَاتِكُمْ ۖ فَلَا تُزَكُّوا أَنْفُسَكُمْ ۖ هُوَ أَعْلَمُ بِمَنِ اتَّقَىٰ
سورة النجم:32

បណ្តាអ្នកដែលចៀសវាងពីបាបកម្មធំៗ និងអំពើអសីល-ធម៌ផ្សេងៗ ក្រៅពីបាបកម្មតូចតាចនោះ ពិតប្រាកដណាស់ ម្ចាស់ របស់អ្នកគឺជាអ្នកទូលំទូលាយក្នុងការអភ័យទោស។ ទ្រង់ដឹងបំផុត ពីលក្ខណៈរបស់ពួកអ្នក ខណៈដែលទ្រង់បានបង្កើតពួកអ្នកពីដី និង នៅពេលពួកអ្នកជាទារកនៅក្នុងពោះម្តាយរបស់ពួកអ្នក។ ដូច្នេះ ចូរ ពួកអ្នកកុំមានមោទនភាពចំពោះខ្លួនឯងថាជាអ្នកស្អាតស្អំឱ្យសោះ ព្រោះទ្រង់ដឹងបំផុតចំពោះអ្នកដែលកោតខ្លាចទ្រង់។

لَيْسَ لَكَ مِنَ الْأَمْرِ شَيْءٌ أَوْ يَتُوبَ عَلَيْهِمْ أَوْ يُعَذِّبَهُمْ فَإِنَّهُمْ ظَالِمُونَ
سورة آل عمران:128

ពុំមែនជាភារកិច្ចរបស់អ្នក(មូហាំម៉ាត់)ទេនៅក្នុងកិច្ច ការនេះ(តែវាជាសិទ្ធិរបស់អល់ឡោះក្នុងការបំបែកពួកគេ) ឬទ្រង់ ត្រូវអភ័យទោសដល់ពួកគេឬដាក់ទារុណកម្មពួកគេ ព្រោះ

Caption

ពួកគេ គឺពិតជាពួកបំពាន។

وَلِيُمَحِّصَ اللَّهُ الَّذِينَ آمَنُوا وَيَمْحَقَ الْكَافِرِينَ
سورة آل عمران:141

និងដើម្បីអល់ឡោះសំអាតបណ្តាអ្នកដែលមានជំនឿ (អំពីបាបកម្ម)និងបំផ្លាញពួកដែលប្រឆាំង។

(al-Quran 3:139-143)

مَنْ كَانَ يُرِيدُ الْعِزَّةَ فَلِلَّهِ الْعِزَّةُ جَمِيعًا ۚ إِلَيْهِ يَصْعَدُ الْكَلِمُ الطَّيِّبُ وَالْعَمَلُ الصَّالِحُ يَرْفَعُهُ ۚ وَالَّذِينَ يَمْكُرُونَ السَّيِّئَاتِ لَهُمْ عَذَابٌ شَدِيدٌ ۖ وَمَكْرُ أُولَٰئِكَ هُوَ يَبُورُ
سورة فاطر:10

អ្នកណាហើយដែលចង់បានភាពថ្កុំថ្កើង គឺភាពថ្កុំថ្កើង ទាំងអស់នោះជាកម្មសិទ្ធិរបស់អល់ឡោះ។ ពាក្យសំដីដែលល្អនឹង ឡើងទៅកាន់ទ្រង់ ហើយអំពើល្អលើកតម្កើងវា(សំដីល្អ)។ រីឯពួក ដែលប្រព្រឹត្តអំពើអាក្រក់ទាំងឡាយវិញ ពួកគេនឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ។ ហើយទង្វើអាក្រក់របស់ពួកទាំងនោះនឹងវិនាស។

អំពី អាប់ទុលឡោះ ពិន អាំរ៍ ពិន អាល់អាស្វ رضي الله عنهما ថា ៖ ណាពី ﷺបានមានប្រសាសន៍ថា ៖ បាបកម្មធំគឺ ការធ្វើស៊ីរិកនឹងអល់ឡោះ អកតញ្ញូ ចំពោះឪពុកម្ដាយ សម្លាប់ជីវិតអ្នកដទៃ និងសម្បថភូតកុហក(ស្បថបំពាន)។
រាយការណ៍ដោយ អាល់ពូខរី
(Riyad as-Salihin 337)

អំពី អាប់ទុលឡោះ ពិន អាំរ៍ ពិន អាល់អាស្វ رضي الله عنهما ដែរថា ៖ រ៉ស៊ូលុលឡោះ ﷺបានមានប្រសាសន៍ថា ៖ ក្នុងចំណោមបាបកម្មធំ គឺការជេរ ប្រមាថឪពុកម្ដាយខ្លួនឯង។ ពួកគេបានសួរថា ៖ ឱ រ៉ស៊ូលុលឡោះ! តើមានអ្នក ជេរប្រមាថឪពុកម្ដាយខ្លួនឬ? លោកបានឆ្លើយថា ៖ មាន គឺបុរសម្នាក់ជេរ ប្រមាថឪពុកគេ គេក៏ជេរប្រមាថឪពុកគាត់វិញ ហើយគាត់ជេរប្រមាថម្ដាយគេ គេក៏ជេរប្រមាថម្ដាយគាត់វិញ។ រាយការណ៍ដោយ អាល់ពូខរី និងមូស្លីម។
នៅក្នុងសេចក្ដីរាយការណ៍ផ្សេងមួទៀតថា ៖ ពិតប្រាកដ នៅក្នុងចំណោមបាបកម្ម ធំ គឺការដាក់បណ្ដាសាឪពុកម្ដាយខ្លួនឯង។ គេបានសួរថា ៖ ឱរ៉ស៊ូលុលឡោះ! តើគេដាក់បណ្ដាសាឪពុកម្ដាយខ្លួនយ៉ាងដូចម្ដេច? លោកបានឆ្លើយថា ៖ គឺបុរស ម្នាក់ជេរប្រមាថឪពុកគេ គេក៏ជេរប្រមាថឪពុកគាត់វិញ ហើយគាត់ជេរប្រមាថ ម្ដាយគេ គេក៏ជេរប្រមាថម្ដាយគាត់វិញ។
(Riyad as-Salihin 338)

Caption

~Sin មានច្រើនប្រភេទដូចជា៖ បាបកម្មពីមុន បាបកម្មនៅ ពេលខាងមុខ បាបកម្មដែលមិនទាន់បានធ្វើ បាបកម្មដោយលាតត្រដាង បាបកម្មដោយកំបាំង បាបកម្មក្រអឺតក្រទមធ្វើដដែលៗ បាបកម្មតូច បាបកម្មធំ បាបកម្មទាំងឡាយៗ បាបកម្មផ្សេងឯទៀត (បាបកម្មដែលអល់ឡោះជាអ្នកកំណត់)

~Sin គឺការធ្វើសាក្សីកុហក

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 5:107)

~Sin គឺការធ្វើ Shirk

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 4:48)

~Sin គឺការប្រឌិតរឿងភូតកុហកអំពីអល់ឡោះជាម្ចាស់

(សំរាប់បាបកម្ម إِثْمَ)

Caption

(al-Quran 4:50)

~Sin គឺការយកខាន់ស្លាពីប្រពន្ធដែលបានរួមរ័ក្សរួច នៅពេលលែងលះជាមួយនាង

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 4:20)

~Sin គឺជាការចោទប្រកាន់ធ្វើបាបអ្នក mu’min ប្រុសស្រី ចំពោះអ្វីដែលពួកគេមិនបានប្រព្រឹត្ត ដូចនេះជននោះនឹងទទួលខុសត្រូវចំពោះការចោទប្រកាន់ និងទទួលបាបកម្មផងដែរ

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 33:58)

~Sin គឺការនិយាយកុហក

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 5:63)

~Sin គឺការមួលបង្កាច់

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 24:11)

~Sin គឺការស៊ីទ្រព្យសម្បត្តិដោយខុសច្បាប់ខណៈដែលបានដឹងថាច្បាប់ហាមឃាត់ហើយនោះ។

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 2:188)

~Sin គឺជាការធ្វើបាបខ្លួនឯង ដោយសារជននោះនឹងទទួលបានអំពើដូច្នោះដែរ

(សំរាប់បាបកម្ម إِثْمَ)

Caption

(al-Quran 4:111)

~Sin គឺជាពួកនរក ហើយនឹងស្ថិតក្នុងនោះជាអមតៈ

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 10:27)

~Sin ជាសាធារណៈ និងជាអាថ៌កំបាំងត្រូវបោះបង់ចោលវា ព្រោះថាការតបស្នងរបស់វាគឺជាអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្តទោះជាអាថ៌កំបាំងក៏ដោយ

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 6:120)

~Sin ជាមូលហេតុដែលអល់ឡោះជាម្ចាស់បំផ្លាញពួកគេ

(សំរាប់បាបកម្ម ذَنب)

(al-Quran 29:40)

~Sin អ្នកប្រព្រឹត្តវា គឺស្ថិតនៅក្នុងចំណោមអ្នកឋាននរក

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 5:29)

~Sin អ្នកប្រព្រឹត្តវា គឺហៅថាអ្នកបំពាន

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 5:29)

~Sin អ្នកប្រព្រឹត្តវា ចូរនឹកឃើញអល់ឡោះជាម្ចាស់ និងសុំអភ័យទោសរាល់កំហុស ទាំងនោះ ដូចនេះអល់ឡោះនឹងអភ័យទោសឲ្យ

(សំរាប់បាបកម្ម ذَنب)

(al-Quran 3:135)

Caption

~Sin អ្នកប្រព្រឹត្តវា នឹងអស់សង្ឃឹមយ៉ាងខ្លាំងនៅថ្ងៃបរលោកមកដល់

(សំរាប់អ្នកសាងបាបកម្ម جرم)

(al-Quran 30:12)

~Sin អ្នកប្រព្រឹត្តវា គ្មានការអន្តរាគមន៍ពីព្រះនានារបស់ពួកគេទេ ដូចនេះពួកគេក៏បាន បដិសេធនឹងព្រះនានានោះដែរ

នៅថ្ងៃបរលោក

(សំរាប់អ្នកសាងបាបកម្ម جرم)

(al-Quran 30:13)

~Sin មុខរបស់ជនដែលប្រព្រឹត្តវានឹងត្រូវគ្របដណ្តប់ដោយផ្នែកមួយនៃភាពងងឹតនាពេលរាត្រី

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 10:27)

~Sin របស់មនុស្សលោក និងជិនមិនត្រូវគេសួរទេនៅថ្ងៃបរលោក

(សំរាប់បាបកម្ម ذَنب)

(al-Quran 55:39)

~Sin របស់ពួកគេនឹងត្រូវបានតបស្នងដាក់សំរាប់ពួកគេវិញ

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 11:114)

~Sin ការតបស្នងរបស់វា គឺជាអ្វីដែលពួកគេធ្លាប់បានប្រព្រឹត្ត

(សំរាប់បាបកម្ម إِثْم)

Caption

(al-Quran 6:120)

~Sin ការតបស្នងរបស់វា គឺដូចអ្វីដែលពួកគេបានប្រព្រឹត្ត ដោយភាពអាប់ឱននឹងគ្របដណ្តប់លើពួកគេ

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 10:27)

~Sin សម្លាប់មនុស្ស និងបាបកម្មផ្សេងៗ នឹងនាំឲ្យពួកយើងចូលទៅក្នុងនរក

(សំរាប់បាបកម្ម إِثْم)

(al-Quran 5:29)

~Sin ត្រូវបានអល់ឡោះជាម្ចាស់ហាមឃាត់

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 7:33)

~Sin មិនត្រូវបានអល់ឡោះជាម្ចាស់អភ័យទោសនោះទេ សំរាប់អ្នកប្រព្រឹត្តអាក្រក់រហូតសេចក្តីស្លាប់បានមកដល់ទើបនិយាយថាខ្ញុំសូមសារភាពកំហុសហើយនៅពេលនេះ ហើយក៏មិនសម្រាប់ពួកដែលស្លាប់ក្នុងសភាពជាអ្នកប្រឆាំងដែរ

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 4:17)

~Sin បានធ្វើឲ្យអល់ឡោះជាម្ចាស់បំផ្លាញពួកគេ ដូចជាពួកមុនៗផងដែរដោយបានបញ្ចុះភ្លៀងថ្មទៅលើពួកគេ និងអ្នកខ្លះក្នុងចំណោមពួកគេត្រូវសម្រែកយ៉ាង ខ្លាំងឆក់យកពួកគេ ហើយអ្នកខ្លះក្នុងចំណោមពួកគេដីបាន ស្រូបយកជីវិតរបស់ពួកគេ ហើយមានអ្នកខ្លះទៀតក្នុងចំណោមពួកគេត្រូវបាន ពន្លិចក្នុងទឹក

Caption

(សំរាប់បាបកម្ម ذَنب)

(al-Quran 29:40)

~Sin ចំពោះការកែប្រែបណ្តាំរបស់សពបន្ទាប់ពីបានឮបណ្តាំនោះរួចហើយ

(សំរាប់បាបកម្ម إِثْمُ)

(al-Quran 2:181)

~Sin មានភាពក្រអឺតក្រទមអួសទាញដើម្បីឲ្យសាងបាបកម្ម កាន់ខ្លាំងបន្ថែមទៀត

(សំរាប់បាបកម្ម إِثْمِ)

(al-Quran 2:206)

~Sin ចំនួនមួយនឹងផ្តល់ទៅឲ្យអ្នកប្រព្រឹត្តអាក្រក់មួយ ដូចនេះជនដែលចេះអធ្យាស្រ័យ និងផ្សះផ្សាគ្នានឹងត្រូវបាន អល់ឡោះជាម្ចាស់ផ្តល់ផលបុណ្យដល់ពួកគេ

(សំរាប់បាបកម្ម سَيِّئَةٍ)

(al-Quran 42:40)

~Sin របស់ជនម្នាក់នឹងហ៊ុមព័ទ្ធជុំវិញខ្លួនដោយសារការប្រព្រឹត្តរបស់គេ ដូចនេះពួកគេនឹងចូលក្នុងនរក

(សំរាប់បាបកម្ម خَطِيئَةً)

(al-Quran 2:81)

~Sin របស់ជន kāfir គឺពួកគេមិនអាចទទួលខុសត្រូវបានឡើយអំពីកំហុសឆ្គងរបស់ខ្លួនឯងផ្ទាល់

(សំរាប់បាបកម្ម خَطَايَا)

(al-Quran 29:12)

Caption

~Sin ជនដែលប្រព្រឹត្តវានឹងទទួលទារុណកម្មដ៏ធ្ងន់ធ្ងរ

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 35:10)

~Sin ជនដែលប្រព្រឹត្តវាបានគិតខុសថា ពួកគេអាចគេចផុត ពីទារុណកម្មរបស់អល់ឡោះជាម្ចាស់បាន ដូចនេះវាជាការ វិនិច្ឆ័យអាក្រក់បំផុត

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 29:4)

~Sin អ្វីដែលពួកគេបានប្រព្រឹត្តនោះនឹងទទួលបានបាបកម្ម នោះជាមិនខាន

(សំរាប់បាបកម្ម إِثْمِ)

(al-Quran 24:11)

~Sin នឹងធ្លាក់ទៅលើខ្លួនរបស់ពួកគេវិញយ៉ាងពិតប្រាកដបើជននោះទម្លាក់កំហុសនោះទៅលើអ្នកដែលគ្មានកំហុស ហើយជននោះក៏នឹងត្រូវគេមួលបង្កាច់ថែមទៀតផងដែរ

(សំរាប់បាបកម្ម إِثْم និង خَطِيئَةً)

(al-Quran 4:112)

~Sin នឹងត្រូវបន្ថែមទៅលើពួក kāfir ដោយសារអល់ឡោះ បានពន្យារអាយុរបស់ពួកគេ ហើយមិនមែនជាការប្រសើរ នោះទេ តែវាគ្រាន់តែជាការបន្ថែមបាបកម្មដល់ពួកគេប៉ុណ្ណោះ

(សំរាប់បាបកម្ម إِثْم)

(al-Quran 3:178)

~Sin នឹងអាចកើតមានចំពោះការពិភាក្សាគ្នាដោយស្ងាត់ៗ ដោយសារវានោះ គឺមកអំពី Satan ដើម្បីធ្វើឱ្យបណ្តាអ្នកមានជំនឿមានទុក្ខព្រួយ ខណៈដែល វាមិនបានធ្វើឱ្យពួកគេមានគ្រោះថ្នាក់ឡើយ លុះត្រាតែមានការ អនុញ្ញាតពីអល់ឡោះ

(សំរាប់បាបកម្ម إِثْم)

Caption

(al-Quran 58:8-10)

~Sin នឹងអាចកើតមានចំពោះការពិភាក្សាគ្នាដោយស្ងាត់ៗ ដោយសារវានោះ គឺអាចនាំឱ្យមានគ្រោះថ្នាក់កើតឡើង

(សំរាប់បាបកម្ម إِثْم)

(al-Quran 58:8-10)

~Sin នឹងវិនាស

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 35:10)

~Sin នឹងមានភាពអាប់ឱនគ្របដណ្តប់លើពួកគេ

(សំរាប់បាបកម្ម السَّيِّئَاتِ)

(al-Quran 10:27)

~Sin និងសត្រូវនៅក្នុងអីស្លាមមិនអនុញ្ញាតិឲ្យជួយគ្នាដើម្បីប្រព្រឹត្តវានោះទេ

(សំរាប់បាបកម្ម إِثْمٌ)

(al-Quran 5:2)

~Sin កើតមាននៅពេលណាយើងមានការសង្ស័យគ្នាទៅវិញទៅមក ឬសង្ស័យទៅលើអ្នកមានជំនឿ

(សំរាប់បាបកម្ម إِثْمٌ)

(al-Quran 49:12)

~Sin មិនកើតឡើងនោះទេសំរាប់អ្នកចង់ប្រញាប់ចាកចេញពី Mina ក្នុងរយះពេលពីរថ្ងៃដំបូងនៃថ្ងៃតាស្ហរិក

(សំរាប់បាបកម្ម إِثْمٌ)

Caption

(al-Quran 2:203)

~Sin មិនកើតឡើងនោះទេសំរាប់អ្នកចង់ពន្យារពេលរហូតដល់ថ្ងៃទីដប់បីនៃបុណ្យ Hajj នោះបើពួកគេកោត ខ្លាចអល់ឡោះ។

(សំរាប់បាបកម្ម إِثْمٌ)

(al-Quran 2:203)

~Sin មិនកើតឡើងនោះទេសំរាប់អ្នកសម្រុះសម្រួលរវាងភាគីនានាដោយកែតម្រូវបណ្តាំមរតកវិញនៅពេលពួកគេបានដឹងថាអ្នកធ្វើបណ្តាំមរតកនោះមានការលំអៀងដោយភាន់ច្រឡំ ឬដោយចេតនានោះ

(សំរាប់បាបកម្ម إِثْمٌ) (al-Quran 2:182)

~Sin មិនកើតឡើងនោះទេនៅពេលត្រូវគេបង្ខំឱ្យបរិភោគឬគ្មានចេតនាបរិភោគមិនលើសពីតំរូវការចាំបាច់នូវសាច់សត្វស្លាប់ដែលឥតបានសំឡេះតាមច្បាប់អ៊ីស្លាម និងឈាម និងសាច់ជ្រូក និងអ្វីដែលគេសំឡេះដើម្បីបូជាម្ចាស់ផ្សេងពីអល់ឡោះជាម្ចាស់

(សំរាប់បាបកម្ម إِثْمٌ)

(al-Quran 2:173)

~Sin មិនអាចកើតមានចំពោះអ្នកដែលមានការចាំបាច់ដោយសារការស្រេកឃ្លាន គ្មានចេតនាប្រព្រឹត្តបាបកម្មទេ

(សំរាប់បាបកម្ម إِثْمٌ)

(al-Quran 5:3)

~Sin មិនអាចកើតឡើងទេបើស្ត្រីនាងយល់ព្រមផ្តល់ខាន់ស្លាទៅប្តីវិញ

(សំរាប់បាបកម្មធំ جُنَاحَ)

(al-Quran 2:229)

Caption

~Sin មិនអាចកើតឡើងទេក្នុងការវិលត្រឡប់ទៅរកគ្នាវិញ ដោយរៀបការសាជាថ្មីបើពួកគេអាចអនុវត្តច្បាប់អល់ឡោះបាន គឺត្រូវរៀបការនឹងបុរសផ្សេងសិន ហើយបើប្តីថ្មីនោះបានលែងលះនាងរួច

(សំរាប់បាបកម្មធំ جُنَاحَ)

(al-Quran 2:230)

~Sin មិនអាចកើតឡើងទេប្រសិនបើឪពុកម្តាយចង់ផ្តាច់ការបំបៅដោះកូនមុនគំរប់រយៈពេលពីរឆ្នាំដោយមានការពិភាក្សានិងឯកភាពគ្នាពីពួកគេទាំងពីរហើយនោះ

(សំរាប់បាបកម្មធំ جُنَاحَ)

(al-Quran 2:233)

~Sin មិនអាចកើតឡើងទេប្រសិនបើជួលអ្នកបំបៅកូនមកជំនួសពួកអ្នកក្នុងការបំបៅកូន បើបានផ្តល់កម្រៃដោយសមរម្យនោះ
(សំរាប់បាបកម្មធំ جُنَاحَ)
(al-Quran 2:233)

~Sin មិនអាចកើតឡើងទេបន្ទាប់ពីរយៈពេល 4 ខែ 10 ថ្ងៃ សំរាប់ស្រ្តីដែលចង់រៀបការជាមួយប្តីថ្មីនៅពេលប្តីដើមបានស្លាប់
(សំរាប់បាបកម្មធំ جُنَاحَ)
(al-Quran 2:234)

~Sin មិនអាចកើតឡើងទេចំពោះជនដែលបានលាតត្រដាងឬលាក់ទុកក្នុងចិត្តពីការស្តីដណ្តឹងស្រ្តីក្នុងកំឡុងពេលដែល ពួកនាងស្ថិតក្នុងរយៈពេលរង់ចាំ 4 ខែ 10 ថ្ងៃនោះ
(សំរាប់បាបកម្មធំ جُنَاحَ)
(al-Quran 2:235)

Caption

~Sin មិនអាចកើតឡើងទេចំពោះជនដែលលែងលះភរិយាមុននឹងរួមរ័កលើកដំបូងជាមួយពួកនាង ឬពុំទាន់បានកំណត់ចំនួនខាន់ស្លាជូនពួកនាងទេនោះ
(សំរាប់បាបកម្មធំ جُنَاحَ)
(al-Quran 2:236)

~Sin មិនអាចកើតឡើងទេបើស្រ្តីមិនចង់ទទួលយកមរតក របស់ប្តី នៅពេលដែលប្តីត្រូវសរសេរបណ្តាំមរតក ហើយបណ្តាំនោះត្រូវមានចំនួនគ្រប់គ្រាន់អាចផ្គត់ផ្គង់រយៈពេលមួយឆ្នាំ និងគ្មានការបណ្តេញនាងចេញពីលំនៅដ្ឋានទេ
(សំរាប់បាបកម្មធំ جُنَاحَ)
(al-Quran 2:240)

~Sin អ្នកសាងបាបកម្មនឹងត្រូវគេស្គាល់តាមរយៈសញ្ញា សំគាល់របស់ពួកគេមានពណ៌ខ្មៅ នៅលើផ្ទៃមុខនៅថ្ងៃបរិលោក ហើយពួកគេត្រូវគេចាប់សក់បង្ហើយ និងជើងបោះគ្រវែងចូលទៅក្នុងនរក

(សំរាប់បាបកម្ម جرم)

(al-Quran 55:41)

~Sin អ្នកសាងបាបកម្មបានបដិសេធមិនចង់ចូលក្នុងនរក Jahannam

(សំរាប់អ្នកសាងបាបកម្ម جرم)

(al-Quran 55:43)

~Sin អ្នកសាងបាបកម្ម គឺធ្វើបាបខ្លួនឯង ហើយអល់ឡោះមិនចង់ធ្វើបាបពួកគេទេ

(សំរាប់បាបកម្ម ذَنب)

(al-Quran 29:40)

~Sin ដែលអល់ឡោះជាម្ចាស់ស្អប់ខ្ពើមមានដូចជា៖

Caption

1.ការសម្លាប់កូនចៅរបស់ខ្លួនព្រោះតែខ្លាចភាពក្រីក្រ

2.Zina

3.ការសម្លាប់ជីវិតដែលអល់ឡោះបានហាមឃាត់

4.ការស៊ីទ្រព្យសម្បត្តិក្មេងកំព្រា

5.ការមិនគោរពកិច្ចសន្យា

6.ការរង្វាស់រង្វាល់មិនត្រឹមត្រូវ

7.ការនិយាយអ្វីដែលមិនបានដឹង ។ ត្រចៀក ភ្នែក និងចិត្ត គឺនឹងត្រូវគេសួរអំពីអ្វីដែលគេបាននិយាយ

8.ការដើរនៅលើផែនដីដោយភាពក្រអឺតក្រទម ។ ពិតប្រាកដណាស់អ្នកមិនអាចពុះជ្រែក ផែនដីបានឡើយហើយអ្នកក៏មិនអាចឈោងខ្ពស់ដូចភ្នំបានដែរ។

(សំរាប់បាបកម្ម سَيِّئَةٍ)
(al-Quran 17:31-38)

•Major and Minor Sin

~al-Kabirah គឺជាបាបកម្មធំ

~al-Lamam គឺជាបាបកម្មតូច

~al-Lamam ជនដែលប្រព្រឹត្តតែបាបកម្មតូច ហើយចៀសវាងអំពី al-Kabirah និង Al-Fawahish (អំពើអសីលធម៌) ផ្សេងៗនោះ ដូចនេះអល់ឡោះជាម្ចាស់នឹងអភ័យទោសដល់ពួកគេ

(al-Quran 53:32)
(Jami` at-Tirmidhi 3284)

~al-Lamam រ៉សូលុលឡោះ ﷺ បានបួងសួងសំរាប់អ្នកប្រព្រឹត្តតែ al-Lamam ថា៖

" إِنْ تَغْفِرِ اللَّهُمَّ تَغْفِرْ جَمَّا وَأَىُّ عَبْدٍ لَكَ لاَ أَلَمَّا "

ការអភ័យទោសរបស់អ្នក ឱអល់ឡោះគឺទូលំទូលាយ
ហើយទៅចំពោះអ្នកគោរពប្រណិប័តន៍របស់អ្នកដែលមិន បានប្រព្រឹត្តបាបកម្មតូច
(Jami` at-Tirmidhi 3284)

~al-Kabirah ដ៏ធំបំផុត គឺ ការធ្វើស៊ីរិកនឹងអល់ឡោះជាម្ចាស់ បន្ទាប់មកការសំលាប់កូនរបស់ខ្លួនដោយសាខ្លាចខ្វះខាតអាហារសំរាប់បរិភោគ បន្ទាប់មកសហាយស្មន់នឹងប្រពន្ធអ្នកជិតខាង
(Sahih Muslim 86 b)
(al-Quran 25:68)

~Sin ធំ ឬកំហុសដ៏ធំ គឺការសម្លាប់កូនចៅរបស់ខ្លួនព្រោះតែ ខ្លាចភាពក្រីក្រ
(សំរាប់បាបកម្មធំ خِطْئًا)
(al-Quran 17:31)

~Sin ធំ គឺគ្រឿងស្រវឹង និងល្បែងស៊ីសង តែក៏មាន ផលប្រយោជន៏ខ្លះដល់មនុស្សលោកដែរ ប៉ុន្តែបាបកម្មរបស់វាទាំង ពីរគឺធ្ងន់ធ្ងរជាងគុណប្រយោជន៏របស់វាទាំងពីរទៅទៀត
(សំរាប់បាបកម្ម إِثْمٌ)
(al-Quran 2:219)

Caption

~al-Kabirah មាន Shahadah az-Zur (ការធ្វើសាក្សីភូតកុហក) ក្នុងចំណោមនោះផងដែរ
(Bulugh al-Maram 1419)

~al-Kabirah នៅក្នុងចំណោមនោះក៏មានការជេរប្រមាថ ឬការដាក់បណ្តាសាឪពុកម្តាយខ្លួនឯងផងដែរ
(Riyad as-Salihin 338)

~ការជេរប្រមាថ ឬការដាក់បណ្តាសាឪពុកម្តាយខ្លួនឯង កើតឡើងនៅពេលបុរសម្នាក់ជេរប្រមាថឪពុកម្តាយអ្នកដទៃ ហើយម្នាក់នោះក៏ជេរប្រមាថឪពុកម្តាយបុរសនោះវិញ
(Riyad as-Salihin 338)

~ជនដែលចៀសពីអំពើបាបធំៗ និងទង្វើអាក្រក់ផ្សេងៗ គឺជាជនដែលនៅពេលពួកគេខឹងសម្បាចំពោះជនណាម្នាក់ ពួក គេតែងតែអភ័យទោសដល់ជននោះ។

(សំរាប់បាបកម្ម إِثْمَ)

(al-Quran 42:37)

~បាបកម្មដ៏ធំចំនួន 7 ដែលបានលើកឡើងនៅក្នុងគម្ពីរ Quran ៖

1.ការប្រព្រឹត្ត Shirk

(al-Quran 4:48)

2.Sihr ឬ Magic

(al-Quran 20:68-69, 2:102)

3.ការសំលាប់មនុស្សដែលច្បាប់មិនអនុញ្ញាតិ

(al-Quran 5:32)

4.ស៊ីការប្រាក់

(al-Quran 2:275)

5.ការស៊ីទ្រព្យក្មេងកំព្រាដោយបំពាន

Caption

(al-Quran 4:10)

6.ការរត់ចោលជួរនៅក្នុងសមរភូមិ

(al-Quran 8:15-16)

7.ការចោទប្រកាន់ស្ត្រីបរិសុទ្ធ ឬស្ត្រីមានជំនឿថាប្រព្រឹត្ត Zina

(al-Quran 24:4-5)

~បាបកម្មដ៏ធំចំនួន 7 ដែលបានលើកឡើងនៅក្នុងគម្ពីរ Quran ក៏បានលើកឡើងក្នុង Hadith ដូចគ្នាផងដែរ៖

1.ការធ្វើស៊ីរិកនឹងអល់ឡោះជាម្ចាស់

2.អកតញ្ញូនឹងឪពុកម្ដាយ

3.សម្លាប់ជីវិតអ្នកដទៃ

4.សម្បថភូតកុហក(ស្បថបំពាន)

5.ស៊ីការប្រាក់

6.ការស៊ីទ្រព្យក្មេងកំព្រាដោយបំពាន

7.ការរត់ចោលជួរនៅក្នុងសមរភូមិ

(Sahih Muslim 89)

~al-Kabirah ដ៏ធំបំផុតជាងគេគឺ៖

1.ការធ្វើស៊ីរិកនឹងអល់ឡោះជាម្ចាស់

2.អកតញ្ញូនឹងឪពុកម្ដាយ ឬមិនធ្វើល្អចំពោះឪពុកម្ដាយ

3.ពាក្យសំដីភូតកុហក និងការធ្វើសាក្សីភូតកុហក

4.ការសំលាប់កូនរបស់ខ្លួនដោយសាខ្លាចខ្វះខាតអាហារ សំរាប់បរិភោគ

5.សហាយស្មន់នឹងប្រពន្ធអ្នកជិតខាង

Caption

(Riyad as-Salihin 336)
(Sahih Muslim 86 b)
(Sahih Muslim 88 b)

~ជនដែលចូលឋានសួគ៌ចុងក្រោយគេ និងចេញអំពីឋាននរក ចុងក្រោយគេនឹងត្រូវគេនាំមក និងបាននិយាយទៅកាន់ថា៖ ចូរបង្ហាញបាបកម្មតូចរបស់គាត់ដល់គាត់ ហើយដកចេញ បាបកម្មធំអំពីគាត់ ។

(នៅថ្ងៃនោះដែរបាបកម្មតូចនឹងត្រូវដាក់នៅចំពោះមុខគាត់ ហើយគេនឹងនិយាយថា៖ នៅថ្ងៃនេះអ្នកបានធ្វើដូច្នេះ ហើយនៅថ្ងៃនោះអ្នកបានធ្វើដូច្នេះហើយដូច្នេះ។ គាត់នឹងនិយាយ

ថា៖ បាទ។ វាមិនអាចទៅរួចទេសម្រាប់គាត់ក្នុងការបដិសេធខណៈពេលដែលគាត់នឹងភ័យខ្លាចក្រែងលោមានអំពើបាបធំបានបង្ហាញនៅចំពោះមុខគាត់។ នឹងមានគេនិយាយថា៖ ជំនួសនៃអំពើអាក្រក់ទាំងអស់អ្នកនឹងមានអំពើល្អ។ ដូចនេះគាត់និយាយថា៖ ឱអល់ឡោះអើយ! ខ្ញុំបានធ្វើរឿងដែលខ្ញុំមិនបានឃើញ...) ។

(សំរាប់បាបកម្ម ذَنب និង سَيِّئَةٍ)

(Sahih Muslim 190 a)



Caption